ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

## ឆ្នាំគម្រប់ពីរ

ខ្សែ ១២




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណើម៉ង្គ

គ្រិ. ឆ្នាំ ១៩២៨

ព. ស. ២៤៧១

អ្នកទទួលខុសត្រូវ ជុំ-មៅ

# បញ្ជីរឿង

# ប្រវត្តិព្រះពុទ្ធរូបពុម្ព

## សាស្ត្រាចារ្យ សេដេស

ជាងហ្វាងសាលាបារាំងសែសនៅចុងបូព៌ាប្រទេស ក្រុងហាណូយ រៀបរៀងជាភាសាសៀម

ព្រះមហាពិទូរ ក្រាសេម

*បណ្ឌិតនៅព្រះរាជបណ្ណាល័យកម្ពុជា ប្រែចេញជាភាសាខ្មែរ*

(ចប់)

---

*នៅមានទីសង្កេតមួយយ៉ាងទៀត ដែលអាចឲ្យកំណត់សេចក្ដីពាក់ទងគ្នារវាងព្រះពុទ្ធអម្បាលនេះ នឹងគណនាចក្រស្រីវិជ័យបាន នឹងអាចឲ្យកំណត់សម័យនៃព្រះពុទ្ធអម្បាលនេះបានផងថា ប្រហែលជាក្នុងពុទ្ធ-សករាជ ១៤៣០-១៧៥០ គឺព្រះពុទ្ធអម្បាលនេះប្រើអក្សរនាគរីដ៏ជាអក្សររបស់ឥណ្ឌាបែកខាងលើ សម្រាប់ចារឹកគាថា យេធម្មា ៗ ។នេះ ក៏បានដឹងជាក់ច្បាស់ហើយថា ក្នុងរវាងពុទ្ធសករាជ ១២៥០-១៤៥១ មានព្រះសង្ឃឥណ្ឌាបែចខាងលើនាំគ្នាទៅប្រដៅសាសនា នៅស្រុកកមទ្រាស ស្រុកជ្វា និងស្រុកខ្មែរជាច្រើនលើក បាននាំយកទាំងអក្សរឥណ្ឌាខាងលើ ទៅប្រើក្នុងប្រទេសអម្បាលនោះផង ពួកប្រទេសនោះៗក៏ទទួលប្រើអក្សររបស់ព្រះសង្ឃដែលមកប្រដៅមួយគ្រាទៅ តែវេលាក្រោយមកត្រឡប់ប្រើអក្សរឥណ្ឌាបែកខាងក្រោម (គឺខាងត្បូង) ដែលធ្លាប់ប្រើមក*

គំពីដើមនោះវិញ អាណាចក្រស្រីវិជ័យជាស្រុកតាំងនៅកណ្តាល ពួកឥណ្ឌាខាងលើចុះមក គេតាំងឈប់សម្រាកនៅទីនោះសិន ហើយទើបទៅកាន់ស្រុកប៉ែកខាងលើ និងកោះជ្វាតទៅ ហេតុដូចនោះមិនគេតែងសង្ស័យឡើយថា អាណាចក្រស្រីវិជ័យ និងមិនមែនជាអាណាចក្រដែលព្រះសង្ឃអម្បាលនោះនាំអក្សរឥណ្ឌាខាងលើទៅប្រើផង ចារឹកភាសាសំស្ក្រឹតនៅស្រុកកលាសានក្នុងកោះជ្វា (ព.ស. ១៣២១) ជាអក្សរនាគរីនោះ ជាព្រះរាជឱង្ការក្សត្រិយ៍ម្ចាស់នៃនជ ក្នុងពង្សសៃលេន្ទ្រ ជាពង្សដែលដឹងឮផងគ្នាថា បានគ្រប់គ្រងប្រទេសស្រីវិជ័យក្នុងវេលានោះ ។

អក្សរនាគរីបែបដែលប្រើនៅស្រុកជ្វា កាលពុទ្ធសករាជ ១៣០០-១៣៥០ នោះ នៅមានប្រើក្នុងប្រទេសកម្ពុជា (ខ្មែរ) កាលពុទ្ធសករាជ ១៤០០-១៤៥០ មួយវិញទៀតនៅមានព្រះពុម្ពដែលចារឹកជាភាសាសំស្ក្រឹតដោយអក្សរនាគរី សម័យពុទ្ធសករាជ ១៤៥០-១៦៥០ នៅក្នុងប្រទេសភូមាទៀតជាតួយ៉ាង ព្រោះហេតុដូចនោះ កាលរួមសេចក្តីដូចបានពណ៌នាមកនេះ ក៏មានហេតុផលល្មមនឹងសន្និដ្ឋានឃើញថា ព្រះពុម្ពជ្រោយមលៃយូនោះ សាងឡើងក្នុងសម័យពុទ្ធសករាជ១៤៥០-១៥៥០ ។

បែបទី ៣ ព្រះពុម្ពទី ៣ នេះ គ្រឿងតែងកាយនិងរូបទ្រង់ព្រាយមានលក្ខណប្រហែលនឹងរូបចម្លាក់របស់ខ្មែរបុរាណ ព្រះពុម្ពដំបូកនេះដែល

បានឃើញជាច្រើន ដូចយ៉ាងរូបទី ៩០ ខាងស្ដាំ និងមេពុម្ពទី ១ ខាងក្រោមនោះ អ្នកដែលបានឃើញរូបចម្លាក់បុរាណ ឬសិលាចារឹករបស់ខ្មែរហើយ រមែងដឹងបានជាប្រាកដតែម្ដង រូប ៣ យ៉ាងប្រកបគ្នា គឺព្រះពុទ្ធអង្គគង់លើនាគ ១, ទេវតាមុខបួន ១, ស្ត្រី ១, រឿងនេះសាស្ត្រាចារ្យសេដេស បានអធិប្បាយទុកក្នុងសៀវភៅប្រវត្តិ ព្រះពុទ្ធរូបសម្រិទ្ធិខ្មែរហើយ ឯរូបទាំង ៣ នេះ ហៅថាព្រះអាទិពុទ្ធ ១, ព្រះពោធិសត្វលោកេស្វរ ១, ប្រាជ្ញាបារមិតា ១, រូបក្រោយនេះជាគ្រឿងសម្គាល់ថាព្រះពុទ្ធជាម្ចាស់អ្នកទ្រង់នូវបញ្ញាជាកំពូល រូបទាំងពីរដែលធ្វើឲ្យស្គាល់បានថា ពោធិសត្វលោកេស្វរ និង ប្រាជ្ញាបារមិតា ព្រោះរូបទាំង ២ កាន់របស់ផ្សេងៗគ្នា គឺព្រះលោកេស្វរដៃលើ ២ ដៃ ១ កាន់ផ្គាំ ដៃ ១ កាន់សៀវភៅ ឬក្រាំង ដៃក្រោម ២ ដៃ ១ កាន់ផ្កាឈូក ដៃ ១ កាន់កណ្ឌីទឹកអម្រឹត ឯប្រាជ្ញាបារមិតា ដៃសាំកាន់សៀវភៅ ឬក្រាំង ដៃឆ្វេងកាន់ផ្កាឈូក ម្យ៉ាងទៀតរូបទាំង ២ នេះ មានគ្រឿងសម្គាល់យ៉ាងដទៃទៀត គឺមានព្រះពុទ្ធរូបគង់ពែនភ្នែនជាកិរិយាសមាធិនៅត្រង់ជើងសក់ពីខាងមុខផង រឿងរូប ៣ យ៉ាងប្រកបគ្នានេះ ប្រទះឃើញអក្សរចារឹកខាងព្រះពុទ្ធសាសនារបស់ខ្មែរបុរាណជាច្រើន ដូចយ៉ាងពាក្យចារឹកជាភាសាសំស្ក្រឹតនៅភ្នំបន្ទាយនាង ជាខាងត្បូងទីក្រុមមឿងខណ្ឌមង្គលបូរី ខេត្របាត់ដំបង ជាពាក្យនមស្ការដល់ព្រះអាទិពុទ្ធ ព្រះលោកេស្វរ និង

ប្រាជ្ញាបារមិតា  ជាសេចក្តីគួរនឹងនាំយកមកចុះក្នុងសៀវភៅនេះផង ព្រោះរឿងនេះ  មនុស្សនៅមិនទាន់ជ្រួតជ្រាបច្រើនណាស់ ។

## ពាក្យនមស្សការអាទិពុទ្ធ

នមោ ស្តុ បរមាទាយ  វ្យោមកាលព្យាយ យោ ធនៅ
ធមិសម្ភោគនិមាណកាយធំ ត្រៃលោក្យមុក្តយេ ។

សូមនមស្សការព្រះបរមជិ (អាទិពុទ្ធ) អ្នកមានកាតដ៏ល្អិតបំផុត ព្យោម (ខ្យល់) ជាអ្នកទ្រង់នូវកាយ ៣ យ៉ាង  គឺធមិកាយ  សម្ភោគកាយ និង និមាណកាយ  ដើម្បីញុំាងត្រៃលោកឲ្យរួចចាកទុក្ខ ។

## ពាក្យនមស្សការព្រះលោកេស្វរ

ភាតិ លោកស្វរេ មូដ្ឋា យោ មិតាភញ្ជនំ ធនៅ
មិតរស្មិប្រកាសនាម  កោរោដ្ឋារ៍ ធសិជាតិវ ។

សូមនមស្សការព្រះ លោកេស្វរដ៏ទ្រង់នូវព្រះអមិតាភពុទ្ធអង្គ អ្នកមានពន្លឺរាប់មិនអស់ ដោយត្បូង (ក្បាល) ភ្លឺរុងរឿងពណ្ណរាយជាងព្រះអាទិត្យនិងព្រះចន្ទ ដ៏ផ្សាយរស្មីបានល្មមប្រមាណ ។

## ពាក្យនមស្សការព្រះប្រាជ្ញាបារមី

ប្រជ្ញាបារមិតាខ្យាយៃ  ភគវត្យៃ នមោ ស្តុ តេ
យស្យាំសមេត្យ  សិរិជ្ញាសិរជ្ញត្វមុបេយុស ។

សូមនមស្ការដល់ព្រះភគវតី អ្នកដែលបានព្រះនាមថា ប្រាជ្ញាបារមិតា ជាអ្នកប្រទាននូវសារពើចំណេះទាំងពួងដល់អ្នក ដ៏មានញាណគ្រប់រូប ដែលដល់នូវព្រះអង្គជាទីពឹង ។

ប៉ុណ្ណោះក៏ល្មមយល់បានហើយថា ព្រះពុទ្ធរូបបីយ៉ាងប្រកបគ្នានេះ ជារបស់ដែលគេកប់អានច្រើន កប់អានខ្លាំងយ៉ាងណា ។

បែបទី ៤ ព្រះពុទ្ធសុខោទ័យពុទ្ធសករាជ ១៧០០ ១៩០០ ព្រះពុទ្ធជំពូកនេះច្រើនតែជាព្រះលីលា (គឺព្រះយាង) តែព្រះលីលានេះមិនបំពោះមានតែព្រះពុទ្ធប៉ុណ្ណោះ មានទាំងសិតទាំងឆ្លាក់យ៉ាងដទៃ ៗ ក៏ជាព្រះលីលានេះជាច្រើនផងគ្នា ព្រះត្រាលីលានេះជារបស់ដែលសៀមក្នុងសម័យនោះចូលចិត្តណាស់ ព្រះពុទ្ធរូបចម្លាក់នៅវត្តមហាធាតុខេត្តសុខោទ័យ ជាតួយ៉ាងនៃព្រះត្រានេះ ព្រះពុទ្ធរូបសម្រឹទ្ធិសំរិទ្ធិត្រាលីលា ២ អង្គ នៅវត្តបញ្ចមបពិត្រ (ក្រុងទេព) នោះ ប្រហែលជាបានមកអំពីវត្តមហាធាតុខេត្តសុខោទ័យនេះឯង ឬបើមិនមែនវត្តមហាធាតុក៏វត្តដទៃ តែគង់បានមកអំពីខេត្រនេះជាប្រាកដ ។

សេចក្ដីកប់អានរបស់ជាតិសៀម ក្នុងការដែលធ្វើព្រះពុទ្ធរូបត្រាលីលានេះច្រើនជាងត្រាដទៃ មើលទៅមិនមែនដោយប្រទះដៃហើយក៏បេះតែធ្វើទៅនោះទេ គឺក្នុងកាលពុទ្ធសករាជ ១៧៥០-១៨៥០ ជាតិសៀមកំពុងពង្រីកអាណាខេត្តឲ្យធូលាយចេញទៅបានគម្រាមប្រទេសជិតខាងឲ្យ

នៅក្នុងអំណាច ពួកសៀមនៅសុខោទ័យក៏ដេញពួកខ្មែរដែលនៅតាមដងទន្លេចៅពញា គឺនៅស្រុកស្រីលេកជាដើម សៀមចូលគ្រប់គ្រងហើយតាំងគោលចាក់ព្រះពុទ្ធសាសនាក្នុងប្រទេសអម្បាលនោះ ចំណែកឯសៀមពួកដែលនៅស្រុកជៀងសែន និងស្រុកជៀងរ៉ាយក៏ដេញពួកមនចេញអំពីដងទន្លេកិង ដូចសៀមសុខោទ័យ ព្រះចៅកុមកំហែង[១] និងអ្នកដែលតំណវង្សអំពីព្រះអង្គ បានសាងព្រះពុទ្ធរូបលីលានេះច្រើនណាស់ណា មិនដឹងបើនឹកប៉ុននឹងប្រមាណ ព្រះចៅមង្រាយច្បាំងឈ្នះក្សត្រិយ៍មននៅស្រុកលំពូន ហើយសាងក្រុងជៀងម៉ៃឡើង ក៏បានទ្រង់សិតព្រះពុទ្ធរូបលីលាឡើងជាច្រើនណាស់ដែរ គួយ៉ាង ព្រះលីលាដ៏ល្អដែលព្រះចៅមង្រាយសាងឡើងនៅស្រុកកុមកាមនោះ មាននៅក្នុងវិហារវត្តកាលកតស្រុកជៀងម៉ៃសព្វថ្ងៃនេះ គំនិតសៀមក្នុងសម័យនោះឃើញថា គ្មានអ្វីនឹងល្អស្មើព្រះពុទ្ធរូបលីលា ទើបបានសាងច្រើនដល់ម្ល៉េះ ដែលខ្ញុំចូលចិត្តដូចនេះ ដោយបានឃើញព្រះពុទ្ធគ្រាលីលា ដែលសៀមសាងឡើងក្នុងសម័យនោះច្រើនពន់ប្រមាណ ហើយមានទ្រង់ទ្រាយល្អៗផង ។

បែបទី ៤ ព្រះពុទ្ធតអំពីសម័យអយុធ្យាចុះមកនោះ គឺព្រះពុទ្ធដែលសាងឡើងក្នុងកាលក្រោយពុទ្ធសករាជ ១៩៥០ ព្រះពុទ្ធជំនាន់នេះ បើពោះបើជាវាយតម្លៃថា ថយថោកជាងព្រះជំនាន់មុនៗក៏ពិត តែជារបស់

---

១- ក្សត្រិយ៍នេះ ក្នុងវង្សពញារោង ។

មានតម្លៃក្នុងផ្លូវវិជ្ជាជាច្រើនណាស់ដែរ លក្ខណៈជាព្រះទ្រង់គ្រឿងបែបដូច ៗ គ្នានៅក្នុងផ្ទះកែវ នៅមានព្រះពុទ្ធរូបគ្រាផ្សេង ៗ គឺអង្គុយខ្លះ ឈរខ្លះ ដើរខ្លះ ដេកខ្លះ ច្រើនធ្វើដោយដីខ្ចុកម្រ័ក្សបិទមាស ៗ

បែបទី ៦ នៅមានព្រះពុទ្ធមួយប្រភេទទៀតជាព្រះតូច ៗ ព្រះនេះគួរនឹងញែកចេញពីបែបដទៃហើយហៅថាព្រះគ្រឿងសម័យ ដែលកើតឡើងនៃព្រះពុទ្ធប្រភេទនេះ ជាការគម្រនឹងកំណត់ឲ្យច្បាស់លាស់ទៅបាន តែមួយប្រភេទទៀតជារបស់ចាស់បំផុត គឺបែបដែលហៅថាព្រះគន់ គឺអ្នកណាមួយមានព្រះនោះនៅនឹងខ្លួនហើយ អ្នកដទៃកាប់មិនមុត បាញ់មិនចេញ គេធ្វើឡើងនៅទីវត្ត មានវត្តមួយនៅក្នុងស្រុកលាំពូន ឈ្មោះជាវត្តព្រះគន់ ៗ នេះ តាំងនៅខាងត្បូងស្រុកលាំពូន ខាងទិសឯជើង ចម្ងាយអំពីទ្វារចេញទៅប្រមាណ ១០០ សិន ព្រះវិហារដែលនៅឃើញសព្វថ្ងៃនេះជាបែបថ្មី តែកងឫសជារបស់ចាស់ សាងតាំងពីគ្រាមនគ្រប់គ្រងស្រុកលាំពូននេះនៅឡើយ មុនសម័យព្រះចៅមង្រាយទៅបានជាធំក្នុងទីនោះ កាលពុទ្ធសករាជ ១៧៤០ កេងឲ្យបោសថប្តូវិហារវត្តនេះគង់ជាបូជនីយស្ថានមួយកន្លែងក្នុងសម័យបុរាណ ព្រោះនៅឃើញមានព្រះពុទ្ធតូច ៗ ច្រើនណាស់ ជាព្រះពុទ្ធរូបគន់ក្រោមដើមពោធិព្រឹក្ស គេធ្វើទៅទីនោះជាអន្លង់មកហើយ ជីកទៅបានក្នុងបរិវេណវត្តនេះច្រើនរយ

ច្រើនពាន់ សូម្បីសព្វថ្ងៃនេះក៏នៅរកបានទាល់តែមានសម្តីថា ថាបើអ្នកណាមានបុណ្យហើយគ្រាន់តែកកាយដីនៅទីនោះ ក៏បានព្រះតែម្តង មិនបាច់ជីកឲ្យជ្រៅទៅទេ ។

នៅមានព្រះគ្រឿងដទៃ ៗ ទៀតច្រើន សឹងមិនអាចនឹងកំណត់សម័យបាន តាំងសព្វថ្ងៃក៏នៅមានមនុស្សចូលចិត្តសាងជាប្រក្រតី ។

រឿងព្រះពុទ្ធដែលបានពោលមកហើយ តាំងអំពីដើមដល់ត្រឹមនេះ ក៏ដើម្បីនឹងសម្តែងឲ្យឃើញថា ព្រះពុទ្ធទាំងឡាយ មានរឿងទាក់ទងនឹងប្រវត្តិព្រះពុទ្ធសាសនា លទ្ធិទំនៀមនិងវិជ្ជាជាងដូចម្តេច ។

សូមឲ្យនឹកដល់ពាក្យទំនាយដែលថា ព្រះពុទ្ធសាសនានឹងអស់ទៅក្នុងកាលគ្រប់កំណត់អាយុ ៥.០០០ ឆ្នាំ ឬនឹងគង់នៅទៀត ២៥.៣០ ឆ្នាំ តាំងតែឆ្នាំនេះជាដើមទៅ ក្នុងរឿងនេះបើប្រសិនជាកើតជាមហាឧទកភ័យ ដែលអាចនឹងចក់ផាត់យករបស់ផ្សេង ៗ ជាដើមថា រោងឧបោសថ វិហារ រូបព្រះសិត និងរបស់ដទៃៗ ទៀតទៅទាំងអស់ សុំឲ្យសល់តែព្រះពុទ្ធ ១ យ៉ាងប៉ុណ្ណោះ អ្នកប្រាជ្ញបុរាណគតិ សម័យក្រោយ ៥.០០០ ឆ្នាំទៅហើយនោះ កាលបានប្រទះឃើញព្រះពុទ្ធហើយនឹងអាចដឹងបានថា សាសនាដ៏ប្រសើរខ្ពង់ខ្ពស់បំផុតជាងសាសនាទាំងពួង ធ្លាប់បានមកចម្រើនរុងរឿងនៅក្នុងអាណាខេត្ត ដែលហៅថាបូពាទិសម្តងហើយជាប្រាកដ គឺព្រះពុទ្ធអម្បាលនេះ នឹងសម្តែងឲ្យអ្នកប្រាជ្ញបុរាណគតិ ជ្រួត

ជ្រាបដល់ព្រះពុទ្ធអង្គដ៏ជាម្ចាស់សាសនា ដែលជាទីរាប់អានរបស់ជនទាំងឡាយ ទាំងជាហេតុឲ្យដឹងដល់ចំណេះវិជ្ជាជាន់របស់ប្រទេសផ្សេង ៗ ក្នុងសម័យផ្សេង ៗ ផង ទាំងឲ្យដឹង ស្គាល់ទេវតាសំខាន់ ៗ ដែលពួកមហាយានសន្សឹម ៗ រាប់អានឡើងក្នុងសាសនាដែលមិនរាប់អានទេវតាមកអំពីមុនផង បើអ្នកប្រាជ្ញបុរាណគតិ អាចប្រែសេចក្តីចារឹកសះន្ទុបទ្វី ៗ ដែលគេចំណាំ តែចារឹកនៅលើព្រះពុទ្ធនោះបានហើយ គេក៏នឹងដឹងបានជាជាលទ្ធិសាសនាដ៏មានខ្លឹមសារច្រើន ។

កាលបើដូចនេះហើយ ក៏នឹងឃើញថា ព្រះពុទ្ធជារបស់វិសេសមែន ហើយការទុកដាក់រក្សាព្រះពុទ្ធជាការសំខាន់ណាស់ ក្នុងទីនេះខ្ញុំសូមអំណរដល់មហាជនអ្នកដែលបានប្រទះឃើញ ព្រះពុទ្ធទុកជាមុនថា សូមឲ្យរក្សាទុកឲ្យល្អ ឬនាំទៅថ្វាយទុកនៅព្រះរាជបណ្ណាល័យកម្ពុជា នោះដើម្បីឲ្យអ្នកប្រាជ្ញពិចារណាមើលលក្ខណៈ ហើយធ្វើសេចក្តីសន្និដ្ឋានឲ្យមុតមាំចុះ តែងជាសេចក្តីអធិប្បាយពន្យល់ ព្រោះពុទ្ធចំណាយផ្សាយជាប្រយោជន៍ទូទៅ ។



# អំពីលំនាំដើមហេតុនៃការដែលបានស្គាល់ប្រាសាទអង្គរ

## លោក វិកទ័រ គោលូបែហ្វ អគ្គលេខាធិការ

*សាលាបារាំងសែសនាចុងបូព៌ាប្រទេស អធិប្បាយ*

ក្រុមការ ជុំ - មៅ ធ្វើរាជការនៅព្រះរាជបណ្ណាល័យ ប្រែជាភាសាខ្មែរ

## ( ត - ចប់ )

---

*លុះដល់មកថ្ងៃ ១៥ ដេសម ឆ្នាំ ១៨៩៨ លោកប៉ូលឌូមែរ បានចេញការរេត ១ ច្បាប់ តាំងសាលាបារាំងសែសនៅចុងបូព៌ាប្រទេស[១] ក្នុងកាលនោះតំបន់ទន្លេសាបនៅជាដែនរបស់សៀមនៅឡើយ មានមន្ត្រីសៀមម្នាក់ស្ដីរាជការនៅសៀមរាប ចម្ងាយ ៤-៥ គីឡូម៉ែត្រពីអង្គរ ដើម្បីនឹងបានទៅមើលអង្គរនោះ អ្នកដំណើរត្រូវទៅសុំសេចក្ដីអនុញ្ញាតពីមន្ត្រីនេះ ឯកិច្ចការដែលស្ទះស្ទើរនោះ បើមិនបានប្ដឹងដល់រាជការស្រុកបារាំងទេ នឹងធ្វើមិនបាន ។*

*សេចក្ដីទាំងប៉ុន្មាននេះ នាំឲ្យទទឹងទាស់ដល់សាលាដែលបានតាំងបង្កើត ហើយដែលមានរបៀបតាមសាលាបារាំងសែសនៅស្រុកអាតែន*

---

១- សាលាអ្នកប្រាជ្ញនេះមានលោក ហ្វីណូត៍ ជាចាងហ្វាងមុនបង្អស់ សាលានេះនឹងធ្វើបុណ្យអភិសេកគម្រប់ឆ្នាំទី ២៥ ជាឆាប់ហើយ ឯកិច្ចការរបៀបសាលានេះ បានបោះពុម្ពក្នុងប៊ុល្លីតាំងរាល់ឆ្នាំ ។

និងរួម នោះមានកិច្ចការដែលត្រូវធ្វើជាច្រើនក្នុងជាន់នោះ មិនទាន់បានចាត់ការរក្សាថែទាំឲ្យដូចជាសាលាឯទៀតផ្សេងៗក្នុងស្រុកក្រិក ស្រុកអ៊ីតាលី និងស្រុកអេស៊ីប នៅឡើយទេ សាលានេះគ្រាន់តែជាអ្នកទទួលការ ព្រោះរបស់ទាំងនេះនៅលើដីសៀម រាជការសៀមទទួលសាលានេះ ដោយកោតខ្លាចប៉ុណ្ណោះ តែជាសំណាងណាស់ ស្ថានទាំងប៉ុន្មាននេះ មិនអាចនឹងឃាត់ឃាំងមិនឲ្យធ្វើការ ក្នុងវេលាដំបូងឲ្យបានចម្រើនឡើយ ។

ក្នុងឆ្នាំ ១៩០០ លោកកុំម៉ង់ដង់ លុណេត៍ ដឺឡាសុងគៀរ បានចូលរុករកក្នុងខេត្តសៀមរាប ដើម្បីគូរផែនទីនៃប្រាសាទទាំងឡាយ ហើយ ១ ឆ្នាំក្រោយនោះវេលាផុតរដូវភ្លៀង កូនសិស្សសាលា ២ នាក់ឈ្មោះ ហង់រី ឌុយហ្វួរ និង សាលិ ការប៉ូ(១) បានទៅកាន់អង្គរធំ សំណាក់ក្នុងសាលា ១ ដែលបានសង់ខ្លួនឯងនៅកណ្ដាលព្រៃស្វាយ និងព្រៃឫស្សី កិច្ចដែលទៅនេះគឺទៅកាប់ឆ្ការព្រៃដែលដុះបាំងប្រាសាទបាយ័ន ហើយពិនិត្យឲ្យសព្វគ្រប់នៃគំនូរនៅកំផែងជញ្ជាំង ។

តាំងពី ២ ឆ្នាំមុនប្រាសាទចម្លែកនេះ នៅបាត់ក្នុងព្រៃនៅឡើយ កំពូលមុខព្រហ្មដែលគេមិនដឹងប្រាកដ ជាមានមុខប៉ុន្មាននោះ មានវល្លិ៍ដុះព័ទ្ធ ហើយដើមឈើដុះពីលើ ទៅដល់ទីនោះ ដោយលំបាកខ្លាំង

---

១- ជាកូនច្បងលោកការប៉ូ ជាជាងចម្លាក់មានថ្វីដៃ ។

ណាស់ អស់ទាំងថ្នាក់ជណ្ដើរបាក់បែកដាច់ពីគ្នា ហើយស្មៅដុះបាំងជិត មើលមិនឃើញ ស្លែនិងសម្បកពីងពាងធ្វើឲ្យរអិលជើងដើរពិបាក តោង យកដៃវែកព្រៃគ្រប់ដំហាន ដើម្បីកុំឲ្យបន្លាវាក់ត្រូវមុខ ឯផ្លូវដែលដើរ នោះមានដុំថ្មដេរដាសពាសពេញនាំឲ្យអ្នកទៅមើល ជៀសវាងដោយលំបាក មានព្រៃដុះចូលរហូតតាមផ្លូវចូលទៅបន្ទប់ធំ អស់ទាំងដើមពោធិ៍ ដើមសម្រោង ដើមរកាដុះក្នុងម្លប់ក្រោមដំបូលប្រាសាទ ឫសឈើទាំង នេះវាក់ប្រទាក់គ្នាដូចជាក្រឡាមងមិនបេះអស់ ជ្រៀតចូលទៅក្នុងក្រហែង ថ្មដែលប្រេះបែកនោះ នៅបន្ទាប់ព្រៃឈើទាំងនេះ បន្តិចឃើញក្បាច់ ចម្លាក់ដេរដាស នៅលើផ្ទាំងនិងសសរខាងនេះ មានរូបទេពអប្សរ ញញឹមប្រិមប្រិយ ខាងនោះមានរូបអ្នកតាចាំប្រាសាទ ខាងនាយទៅទៀត មានផ្ទាំងដែលមានស្លែកាន់ក្រហមឬលឿង ហើយមានពស់សម្លាប់ កង្កែបស្ទុះរត់ដោយភ័យ ដែលឡើងទៅលើកន្លែងខ្ពស់នោះ ពិបាកដោយ ពន់ពេកណាស់ ហើយជាក្រោយដែលរអិល ជាក្រោយដែលសម្រាក កម្លាំងជាច្រើនដង ទើបឡើងបានដល់ទៅកំពូលប្រាសាទ នៅទីនោះ ឃើញតែពណ៌បៃតងដេរដាសនៅលើមុខព្រហ្មទាំង ៤ ។

អស់ទាំងសំបុត្រនិងកាសែតមានសៀវការប៉ី ដែលគេបានបោះ ពុម្ពជាក្រោយដែលគាត់ស្លាប់នោះ ធ្វើឲ្យយើងឃើញសេចក្ដីចម្រើននៃ

ការតាំងឡាយ[1]ចំពោះមុខ គាត់បានសរសេរ ពីថ្ងៃ ១៨ ដេសម ១៩០២ ថា ថ្ងៃល្អរបស់សាលា អំពីកាប់ក្តារ ១ កន្លែង នៅមុខប្រាសាទខាងជើង ហើយប៉ុន្មានថ្ងៃក្រោយនោះបន្តិច គឺថ្ងៃ ៣១ ដេសម ដុសលាងកំផែងជញ្ជាំង ខ្ញុំយកដែកធ្លាក់ក្តើសអាចម៍កណ្តៀរ ដែលពួនជាប់បំបាត់ក្បាច់ចេញ ថ្ងៃស្អែកទឹងបានឃើញក្បាច់ចម្លាក់នៅជញ្ជាំង ច្បាស់ល្អហើយ ហើយដល់មកថ្ងៃ ៦ ហ្វេវ្រិយេរ គាត់សរសេរថា ក្បាច់ជញ្ជាំងឃើញច្បាស់ឡើងហើយ ខ្ញុំមានសេចក្តីសោមនស្សជាបំផុតចិត្ត នៅវេលាដែលឃើញស្នូទិងដីបានរបើកចេញ ហើយបានឃើញរូបចម្លាក់នោះមានសណ្ឋានដូចជារស់រវើកឡើង ។

មិននែនជាការងាយជាដកបេទ ដែលលើកថ្មទៅដាក់នៅកន្លែងចាស់ ដោយថ្មទាំងនោះដូនកាលជាប់នៅនឹងអ៊ីបន្តិច ៗ អស់ទាំងគូលីរៀនទម្លាប់ប្រើរូឡូតាមបែបដែលបង្គាប់ឲ្យប្រើការ ដែលកាប់គាស់ឫសឈើនិងវល្លិចេញនោះ មិនមែនមិនលំបាកឡើយ ដូនកាលមែកឈើក្រេតទៅលើជញ្ជាំងមានដើមឈើដុះសង្កត់លើថ្ម ហើយធ្វើឲ្យថ្មបាក់បែកដោយកន្លែង តែធ្វេសបន្តិចនាំឲ្យស្រុតធ្លាក់កំពូល ១ ឬស្រុតបាត់ដំបូល ១ លុះការគាស់កកាយដុះលាងជញ្ជាំងជូនល្មម ទឹងពិនិត្យមើលក្បាច់ដែលធ្លាក់បាននោះ ក៏តាំងចាប់រៀបចំថតយក ឯកិច្ចការដែលលាង

---

១- សាលិការប៉ូ អំពីប្រាសាទអង្គរ (ប៉ារីស ១៩០៨) ។

កញ្ចក់នោះ · គេបានរៀបកន្ទេល ១ ប្រក់ស្បូវប៉ាំងហ៊ុមជិត នៅគេកោសដក ដង្ហើមត្រឹម ៣.៣ អង្សា ហើយណាស់ពេលយប់ ។

ទោះណាជាមានព្យាយាម និងបានសង្កាត់ធ្វើទាំងអម្បាលនេះ ក៏ ព្រះអោះនិងប្រាសាទទាំងនេះ ហាក់ដូចជារឹតតែមានការធំ ៗ ដែលត្រូវ តែធ្វើដល់ប្រាសាទបាយ័នជាច្រើនទៅទៀត ម៉ោងសៀរការរ៉ូបាន សរសេរក្នុងលិខិតទី ៨ របស់គាត់ថាដូចនេះ ។

ខ្ញុំឃើញថាយើងធ្វើការមានប្រយោជន៍ យើងបានរកឃើញអស់ ទាំងប្រាសាទ ដែលមានតែឥដ្ឋកក្រកនរក ដោយពិតដូចយ៉ាងលោកម្វ-រ៉ា, ដីឡ្យាពារតិ, ដីឡាក្រេ, អេម៉ូងិយេ ទើបបានរកឃើញ យើង បានរករបស់ទាំងនេះឃើញអស់ ហើយចាប់ធ្វើជាថ្មីឡើងវិញ យើង មានសេចក្តីអំណរនិងសេចក្តីស្ញប់ត្រពន់ពេកណាស់ ហើយក្នុងសំបុត្រជ-ដែលនេះ មានសេចក្តីថាដូចនេះ ខ្ញុំរឹងរឹតតែស្រឡាញ់ព្រៃស្បាតឡើង បន្តិចម្តង ៗ ។

លោកសង្ឃទាំងឡាយ កាលដើមមិនរវល់ឡើយ ហើយក្រោយ មកចូលជួយក្នុងការនេះ បានជ្រៀតចូលទៅក្នុងចំណោមពួកគូលី ជួយ លើកថ្មចេញ នៅវេលាដែលលោកសង្ឃទាំងនេះនិមន្តកាត់កណ្តាលថ្ងៃ នោះ មើលទៅស្បង់ចីពរហាក់ដូចជាឆេះភ្លើង មានលោកសង្ឃជាច្រើន ចាប់ឈើគ្រទ ហើយ អោងសៀរការរ៉ូ ក៏ថែទាំជម្ងឺឲ្យ ឯបារាំង

សែសទាំង ២ នាក់នេះទៀត ក៏ចាប់ជម្ងឺឈឺក្រោយនោះបន្តិចដែរ ដោយអំណាចភេទអាកាសមិនល្អ ហើយមុនទឹងចូលឆ្នាំថ្មីមក មោនសៀរការប៉ូ កត់សេចក្តីថាដូចនេះ យើងតាំងចាប់ឈឺហើយដោយអំណាចជម្ងឺគ្រុនចាញ់ ។

ឯការដែលបានធ្វើនោះ ក៏សាក់ខានទៅកណ្តាលខែហ្វេវរីយេ មោនសៀរ ឌុយ ហ្វ្រូរ ក៏ទៅឯស្រុកឈាវ មោនសៀរការប៉ូ ក៏ត្រឡប់មកក្រុងភ្នំពេញវិញ មានរេះ ១៨ ផ្ទុក ប្រដាប់ថតនិងពុម្ពមក ។

លុះដល់រដូវក្តៅក្នុងឆ្នាំ ១៩០៤ គាត់ត្រឡប់ទៅអង្គរវិញ សេចក្តីអំណរដែលគាត់ទឹងបានឃើញព្រៃវិញនោះ នាំឲ្យគាត់សរសេរទុកប៉ុន្មានបន្ទាត់នេះដែលគេទុកដាក់គាត់ជាសិស្ស របស់សិងហ្វ្រូងស្វា ដែលគេមិនស្គាល់ ។ ឯពាក្យដែលគាត់សរសេរនោះថាដូចនេះ " ខ្ញុំដេកលើពូករបស់ខ្ញុំដែលបម្រើធ្វើ ហើយមានសេចក្តីខ្វិលប្រអូស ដោយអស់កម្លាំងនិងធ្វើការពីព្រឹក ក្នុងព្រៃទាំងអស់ស្ងាត់ជៀប អស់បក្សីទាំងឡាយសម្ងំដេកអស់ មានតែសត្វអន្ទ្រោណចង្រិតរៃទ្រី មានសត្វតូច ៗ ជាអនេកដែលរស់ដោយថ្ងៃនិងដោយពន្លឺ សត្វទាំងនេះប្រគំតន្ត្រីពុកង់រំពងជុំវិញសាលា តាមបែបការ តែរៀងខ្លួន តាំងពីសត្វរៃធំដែលមានសម្លេងខ្លាំងទៅដល់សត្វរៃតូច ដែលមានសម្លេងស្រួចដូចជាម្ជុល សម្លេងសត្វទាំងប៉ុន្មាននេះនាំឲ្យទ្រហ៊ឹងអឹងកងក្នុងព្រឹក្សាមនុស្សដែលសរសេរទាំងប៉ុន្មាន

បន្ទាត់នេះ មិនមែនជាមនុស្សមានកម្លាំងមាំមួនឡើយ គឺជាមេមានសៀ-ការប៉ូពីឆ្នាំ ១៩០៧ នោះឯង ការដែលបើករបស់បុកណានៅស្រុកអណ្ណាម គឺស្រុកយួននាំឲ្យគាត់អស់កម្លាំង ហើយការដែលគាត់បានធ្វើនោះក៏បានហើយស្រេច ទើបគាត់ដល់មរណភាព ២-៣ខែក្រោយនោះ នៅស្រុកព្រៃនគរក្នុងអាយុ ៣៤ ឆ្នាំដោយជម្ងឺមួល ការតាំងឡាយដែលមិស្យុង-ឧហ្វរ-ការប៉ូបានប្រមូលផ្ដុំនោះ ពួកកុំមិស្យុងក្បាច់អលង្ការណ៍នៅប្រទេសឥណ្ឌូស៊ីន បានបោះផ្សាយឡើងក្នុងឆ្នាំ ១៩១០-១៩១៣ ហើយដាក់ចំណងជើងថា "បាយ័នអង្គរធំ" អស់តាំងរឿងរ៉ាវដែលជាប់នៅជញ្ជាំងប្រាសាទដ៏ប្រសើររបស់ខ្មែរ ។"

ការដលចេះដឹងក្នុងរឿងរ៉ាវនៅកំផែងជញ្ជាំងនេះ ជាមានប្រយោជន៍ណាស់ ដើម្បីរិះរកសេចក្ដីស៊ីវិល័យរបស់ខ្មែរ លោកគ្រោសលីយេបានតែងសេចក្ដីដ៏ប្រសើរអំពីជាតិខ្មែរក្នុងសៀវភៅលោក[1] ហើយគោលដើមនោះមិនអន្ដរាយទៅណាឡើយ ឯរឿងរ៉ាវនៅកំផែងជញ្ជាំងអង្គរវត្តតាំងប៉ុន្មាននោះ ក្រៅពីក្បាច់អលង្ការណ៍សុទ្ធតែធ្លាក់ជារឿងរ៉ាវតាំងអស់ ដែលមានរឿងខ្លះធ្វើតាមរឿងស្រុកឥណ្ឌូ ឯរឿងរ៉ាវដែលធ្លាក់នៅប្រាសាទបាយ័ននោះបានចារឹកជាអក្សរធ្វើឲ្យយើងបានដឹងជាប្រាកដ អំពីពង្សាវតារក្នុងមហារជ្ជកាល គឺអំពីជ័យជំនះនិងអប្បរាជ័យ អំពីគយុទ្ធចំបាំងលើដី

---

១- ការរិះរកអំពីជាតិខ្មែរ (ប៉ារីសឆ្នាំ ១៩២១) ។

និងក្នុងសមុទ្រ  អំពីស្តេចយាងទៅកាន់ទីសំរេចជ័យស្ថាន  អំពីសេចក្តីសោមនស្សរបស់បណ្តារាស្ត្រ អំពីពិធីបុណ្យក្នុងសាសនា រឿងរ៉ាវផ្សេងៗនោះឃើញធ្លាក់តគ្នា ១ ជុំ ១ គណ្ឌៗ មិនមែនជាតរៀងគ្នា  រហូតដូចជាកាំប្រវាក់នោះឡើយ  ចម្លាក់ទាំងនេះបន្ទុំនូវសេចក្តីគោរព  និងការសឹកសង្គ្រាមរបស់ស្តេចដែលព្រះព្រហ្មទ្រទ្រង់  ហើយដែលហាក់ដូចជាកាន់កាប់ការផែនដីនោះ  ដោយមានពួកកាន់សាសនាព្រះឥសូរជួយផង  តើនរណាជាក្សត្រិយ៍នោះ  គឺជាយសោវរ្ម័នជាក្សត្រិយ៍ដែលគេថាបានសាងអង្គរធំបង្ហើយ  ហើយដែលចាប់គ្រងរាជ្យក្នុងឆ្នាំ ៨៨៩ នោះឬអ្វី  សេចក្តីមិនច្បាស់ប្រាកដមាននៅឡើយ  លើប្រាសាទបាយ័នព្រមទាំងក្សត្រិយ៍ដែលសាងប្រាសាទនេះ  ពិតមែនតែមានរឿងរ៉ាវខ្វះបញ្ជាក់ក្នុងសេចក្តីនេះ(១)  ហើយម្យ៉ាងទៀតក្នុងវេលាសព្វថ្ងៃនេះ  គេមិនអាចនឹងឈ្វេងយល់បានអំពីគេទព្រះដែលគេគោរពនៅប្រាសាទបាយ័ននោះ  សេចក្តីរិះរកទាំងនេះមិនអាចជ្រះស្រឡះឡើយ  ដោយការដែលគេឃើញជាខាងក្រោយ  រឹតតែនាំឲ្យបានសេចក្តីច្រើន  ជាប់ទៅលើចំណោទយ៉ាងជ្រៅរបស់ប្រាសាទបាយ័ន ។

---

(១) ក្នុងរឿងរ៉ាវពង្សាវតារអំពីស្រុកខ្មែរចាស់នោះមានសៀរអេមូនីញេ បានតែង១ បរិច្ឆេទ បរ៉ែងសំខាន់អំពីក្សត្រិយ៍នេះ  ដែលគេអាចនឹងទុកដាក់បានថាជាស្តេចតម្លង់ក្នុងរឿងរ៉ាវរបស់ស្រុកអាយ ។

លក្ខណបញ្ញត្តិ នៃសេចក្ដីសញ្ញាបារាំងសែសនិងសៀម កាលពីឆ្នាំ ១៩០៧នោះ មានសេចក្ដីថា ត្រូវប្រគល់ឲ្យក្រុងកម្ពុជាវិញ ខេត្តសៀមរាប ១ ស៊ីសោភ័ណ ១ និងបាត់ដំបង ១ ដំបន់ទន្លេសាបនោះ ក៏ចូលទៅក្នុងដែនដែលបានមកវិញដែរ ក្រុងបារាំងសែសជាប់កិច្ចត្រូវថែទាំរក្សានៃប្រាសាទអង្គរ ។

តាមទំនាយរបស់អ្នកស្រុក ដែលជាតិពរទុយគេសម្នាក់ឈ្មោះវីបាដឺណីក បានចារិកទុកក្នុងឆ្នាំ ១៣០០នោះថា៖ ក្រុងចាស់របស់ខ្មែរត្រូវមានប្រទេសដទៃមកសាងជាថ្មី បើសាងប្រាសាទអង្គរជាថ្មីឡើងវិញនោះ ជាការប្រព្រឹត្តអំពើល្មើសជាឧក្រិដ្ឋ១ ប៉ុន្តែគេអាចនឹងបញ្ឈប់សេចក្ដីវិនាសនឹងការពារកុំឲ្យវិនាសដោយព្រៃឈើទៀតបាន ។

កាលក្នុងពង្សសៀមនៅឡើយ ប្រាសាទបុរាណទាំងនេះ បានប្រគល់ឲ្យលោកសង្ឃរក្សា អស់ទាំងលោកសង្ឃទទួលអ្នកដំណើរ និងអ្នកទៅមើលនៅក្នុងប្រាសាទ បោសសំអាតទីធ្លា ថែទាំនិងជណ្ដើរ អុជទៀនធូបនៅមុខព្រះពុទ្ធរូប ដែលបានជួសជុលនិងលាបឡើងជាថ្មី សេចក្ដីគោរពអ្នកបួសទាំងនេះ ផ្សាយដល់រូប ដែលបាក់បែកដោយចំណែក ៗ ហើយជួនកាលក៏ដើរទៅរក បំណែកព្រះហស្តនិងព្រះកេស ដែលបាក់បែកខ្ចាត់ខ្ចាយក្នុងព្រៃ ប៉ុន្តែសេចក្ដីគោរពស្លូតត្រង់របស់លោកសង្ឃទាំងនេះ នាំឲ្យមានគ្រោះកាចដល់ប្រាសាទ គេដឹងថាការជួសជុលដែលមិន

ប៊ុនប្រសប់នោះ នាំឲ្យអន្តរាយដល់ប្រាសាទចាស់ ប្រទេសអាស៊ីលើកតែស្រុកជប៉ុនចេញនោះ មិនបានបោះបង់ក្បួនខ្នាតចោលឡើយ អស់ស្តូបតាំងឡាយដែលជាទំនើបថ្មី នៅស្រុកបៀរម៉ានី (ភូមា) និងនៅស្រុកសីឡង់ (កោះលង្កា) បានជាតាងដល់យើងជួនបរិបូណ៌ ឯខ្លោងទ្វារគន្ធរវត្តដែលចេតនេះ បានធ្វើអំពីថ្មកក់ ហើយកាលក្នុង ១០០ឆ្នាំមុននោះ គេបានរើសយកកំពូល ១ តាំងមូលដែលល្អជាងគេទៅឯស្រុកបាងកក ហើយយកទៅសង់នៅក្នុងកំផែងវត្ត ទំនងមានសេចក្តីវែងឆ្ងាយពេកណាស់ ប្រសិនបើរៀបរាប់អំពីសេចក្តីដែលគេបានធ្វើ ឲ្យអន្តរាយទៅគ្រប់វេលាមុន ដែលបាក់ងសែសមកដល់ បើដូចនេះគ្រាន់តែរៀបសេចក្តីតែ ១ ទក៏គួរហើយ គឺអំពីប្រាសាទបាពួនទៅមុខខាងកើតនៃប្រាសាទនេះ មានកែប្រែ គឺបានប្រមូលផ្តុំនូវថ្មដែលខ្ចាត់ខ្ចាត់ចេញផ្តេសផ្តាស ដើម្បីជាពុទ្ធរូបដ៏ធំឡើង រឿងក៏វនោះ មានជាច្រើនទៅទៀត អំពីដែលគេបានធ្វើបំផ្លាញឲ្យខូចអន្តរាយនោះ លុះតែបាត់ការថែទាំផ្សេងលើប្រាសាទនេះ ទើបបានគង់ឋិតថេរទៅទៀតបាន(១) ហើយមានវត្តជាច្រើន ទើបសាងថ្មីនៅក្នុងខេត្តសៀមរាប នោះបានយកថ្មពារីកទីងកន្លែងប្រជុំបុរាណមកសាង ។

---

១- អំពីក្បាច់ចម្លាក់ប្រាសាទនេះដែលគេលើកទុកជាដើម ១ ក្នុងក្បាច់ចម្លាក់ខ្មែរ នោះឲ្យមើលរឿងក្បាច់នៅឧញ៉ាំងបាពួន ដែលលោកសៀវស៊ីហ្វីណូតបានតែងពីឆ្នាំ ១៩១០ (ប៊ុលីតាំងក្រុមកុំមីស្យុងក្បាច់អស់ង្គរណ៍ក្នុងប្រទេសឥណ្ឌូស៊ីន ) ។

ដោយអំណាចសញ្ញាត្រេតពីឆ្នាំ ១៩០៧ នោះសាលាបារាំងសែសនៅចុងបូព៌ាប្រទេស មានអំណាចជាអ្នកត្រួតត្រានៃអង្គរគ្មានអ្នកឯណា ១ នឹងរើងទឹងបាន ឥឡូវនេះ សាលានេះអាចនឹងតាក់ការរិះរកតាមលំអានដែលមោនសៀរ ហង់រីប៉ារម៉ង់ទេ ជាតាងហ្វាង់ក្បាច់អលង្ករណ៍ បានតុប-តែងឡើងក្នុងការរិះរកនៅស្រុកអាណ្ណាម ការដែលតាំងភ្នាក់ងារម្នាក់ឲ្យត្រួតត្រានឹងថែទាំរក្សានៃប្រាសាទបុរាណនេះ ប្រហែលជាមានប្រ-យោជន៍ពន់ពេកណាស់ ដោយហេតុនេះ ទើបសាលាបានរើសយកខ្លួនមោនសៀរសង់កុំម៉ៃ ដែលជាពួកក្រុមនៃសាលាដ៏ឆ្ងៀវឆ្លាតរហ័សរហួន អង្គរក៏តាំងមានអ្នកថែរក្សាថែទាំនៅយ៉ាំងក្បាច់នៃប្រាសាទ តាមបែបដែលគេបានធ្វើ ឯប្រាសាទនៅក្រុងវែរសៃនិងនៅក្រុងហ្វង់តែណឺប្លូ ។

កិច្ចការជាដំបូងនោះ គឺកាប់ឆ្ការព្រៃអង្គរវត្ត និងជួសជុលកន្លែងនានាដែលខូចខាតបាក់បែកជាច្រើនជាងគេ ប្រាសាទយ៉ាងធំ ដែលមានស្រះនិងកំផែងនៅកណ្ដាល ដែលមានទីបរិវេណនិងទីធ្លាក្រាលថ្ម ទំហំធំជាង ១០០ ហិកតារ ក្នុងកាលនោះកប់បាត់នៅក្នុងព្រៃស្បាតនៅឡើយ ដូចកាលជាន់លោកឌូដារត៍ដឺឡាក្រេថែរ គេដើរវង្វេងនៅកណ្ដាលវល្លិ៍និងឫស្សី ត្រូវតែទំប្រឹងយ៉ាងយូរហើយអត់ធ្មត់ ទើបអាចនឹងសម្រេចតាមប្រូក្រាមដែលសាលាតាក់តែងបាន គេទំផ្សំថ្មម្ដងៗដើម្បីផ្គុំនៅផ្លូវដែលក្រាលថ្មនិងខឿនដែលមានក្បាលនាគ ដុំថ្មដែលបាត់បង់ទៅនោះ

រកឃើញឡើងវិញក្នុងស្នាមក្លោះ បណ្ដោយតាមរឿង ហើយក្រោយបន្តិចៗមក គេបានកាប់រំលំដើមឈើជម្រះស្មៅនិងកាត់វល្លិ៍ចេញ គេទុកតែដើមពោធិដែលល្អៗ និងដើមត្នោតខ្លះ អស់ទាំងទ្វានិងថែវនោះបានកងពីដើមឡើងវិញ នៅខ្លះតែគ្រឿងតុបតែងពីសំពត់ និងពីឈើលាបថ្នាំនិងលាបមាស អស់ទាំងរូបសិង្ហពីថ្មនិងរូបនាគនោះ នៅឈរលើកន្លែងដដែល ហើយឯស្រះនិងត្រពាំងនៃប្រាសាទនោះ ក៏បានដុសលាងសំអាតដល់បាត ហើយមានទឹកដក់នៅ ដុះដើមឈូកក្រហមសឈររហង់ ។

ក្នុងវេលាជាមួយនេះ បានចាត់ចែងការនៅអង្គរធំ ដែលជាទីក្រុងធំមានជញ្ជាំងកំផែង បានកាប់ឆ្ការព្រៃក្នុងដំបន់ដែលចាញ់ជាងគេ ក្នុងព្រៃនោះដែលដុះបាំងទ្វារចូលទាំង ៥ តពីនោះគេបានទឹកទៅឯប្រាសាទបា-យ័នទៀត ប្រាសាទនេះយើងក៏បានដឹងហើយ គឺមានសៀរឌុយហ្សូរ-ការប៉ូ បានគាស់កកាយកន្លែងខ្លះទៅហើយ ប៉ុន្តែរូបចម្លាក់នោះនៅកប់ក្នុងស្មូតណាបែកនៅឡើយ ឥតមានចាប់ធ្វើការអ្វីឲ្យមាំមួននៅឡើយទេ ការកាប់ឆ្ការព្រៃនៅប្រាសាទបាយ័ននោះ នាំឲ្យមានពាក្យនិន្ទាដូចកាលក្នុង ២៥ ឆ្នាំមុននោះ មានពាក្យនិន្ទាដល់លោកកុំម៉ង់ដឺយាកូប៉ូឌី ដែលបានកាប់ឆ្ការនីរកក្នុងស្រុករ៉ូម មានបណ្ដាជនខ្លះស្ដាយស្មៅដែលសត្វពពែធ្លាប់ស៊ីលើព្រះលានដែលឈើព្រៃដុសលប់ ហើយដែលមានលតាវល្លិ៍

ដុះក្រាលពេញទូទៅលើប្រាសាទបុកណោះ មិនតែប៉ុណ្ណោះ មានទាំងអ្នកដំណើរដែលដើរតែងសេចក្ដីបានបញ្ចេញនូវសេចក្ដីប្រាថ្នាថា សុំឲ្យបានឃើញព្រៃដុះលើប្រាសាទបាយ័នទៀត ហើយឲ្យបានមានភាពបែបដូចកាលដើមវិញ ។

គួរតែរំលឹកសេចក្ដីនេះថា ប្រាសាទបាយ័នជាគំរូ១នៃក្បាច់អលង្ការណ៍ខ្មែរ មានប្រយោជន៍ដល់អ្នករៀនរចនា និងអ្នករៀនពង្សាវតារ ហើយការដែលពិនិត្យមើលនោះ លុះតែប្រាសាទទាំងមូលមានពន្លឺចាំងចូលច្បាស់ ទើបនិងពិនិត្យបាន យើងបន្ថែមសេចក្ដីនេះទៀតថា ក្នុង ២-៣ ឆ្នាំទៅមុខ ប្រហែលជាប្រាសាទបាយ័ននេះផ្លាស់ប្រែកងកេចេញ ដោយគេបានត្រួតត្រាកាប់ឆ្ការព្រៃចេញ ។

វេលាដែលបានតាំងក្រសួងកជការក្បាច់ឧលង្ការណ៍ជាទិច្ច នៅអង្គរនោះ បានតាំងកជការមៃព្រៃជាបន្ទាប់ទៅទៀត ។

លោកសារល័តែរ៉ូល បានអធិប្បាយខាងចុងសេចក្ដីរបស់លោកអំពីរឿងកជធីតាម្នាក់ដែលដុំក្នុងព្រៃ អំពីការដែលមានឡើងជាក្រោយកជធីតានោះភ្ញាក់ថា មាននាងទេវកញ្ញា ១ បានធ្វើឲ្យព្រៃដុះឡើងជុំវិញក្នុង ១៥ មិនុត ប្រហែលជាដែលគេគិតកាប់ឆ្ការស្បាត និងបន្ទាចេញពីផ្លូវនិងពីទីធ្លា ហើយធ្វើឲ្យមានអាកាស ដល់ឈើទាំងឡាយនោះឯង ។

ឯខាងចំណែកអង្គរនោះ ត្រូវតែធ្វើព្រៃឲ្យបាត់ស្បាតជាដើម ហើយ

ផ្ការធ្វើផ្លូវ បោចវល្លិ៍និងច្ងាសព្រៃកុំឲ្យលូតលាស់ច្រើនពន់ពេក និងរៀបចំឲ្យផុះតាមបែបយ៉ាងល្អ ក្រោយតមកទៀតព្រៃដែលបណ្ដាលឲ្យគ្រុនចាញ់ដែលមានជុំវិញប្រាសាទនោះ ត្រឡប់ទៅជាសួនព្រៃធំដែលមានមនុស្សថែទាំជិតជុំវិញ គឺហៅថាសួនអង្គរអស់ទាំងស្មៅបញ្ញើកំលែងផុះផ្ញើរលើដើមឈើដែលគេត្រូវត្រាថែទាំទៀតហើយ ។ សព្វថ្ងៃនេះមានតែដើមឈើទាលធំៗ កងស្រលូតដុះជាជួរដេរដាសទៅ ។

ពួកអ្នកដំណើរទាំងឡាយ ដែលទៅដោយរថយន្តក្ដូនផ្លូវត្រជាក់ ដើម្បីនឹងមើលប្រាសាទអង្គរ នោះមើលតែប្រាសាទធំៗ កំណត់ពីរថ្ងៃទើបបានចប់ឥតមានសម្រាក ក្នុងគ្រាឥឡូវដោយអំណាចការដែលបានធ្វើថ្មី នោះនឹងមើល ១ ស្របក់អាចចប់បាន ហើយបណ្ដាជនទាំងនេះមិនអាចនឹងសង្ស័យ អំពីសេចក្ដីខំសង្វាតដែលចម្រើនឡើង ដើម្បីការពារដល់ជនទាំងនេះ សេចក្ដីនឿយព្រួយឥតប្រយោជន៍ និងការពារនៃគ្រុនចាញ់ កុំឲ្យជិតដល់ផង(១) ។

ពិតមែនតែបានកែប្រែបថកេទព្រៃ ដែលដុះក្នុងប្រាសាទក្នុងប៉ុន្មានឆ្នាំមុននេះ ប៉ុន្តែការកាប់ផ្ការនេះមិនទាន់សព្វកន្លែងនៅឡើយ នៅមាន

(១) អំពីរឿងនេះយើងកត់សម្គាល់ អំពីដែលបានបង្កើតក្រុមសង្គហការ ១ ដែលហៅជា “ក្រុមសង្គហការបណ្ដាមិត្រនៅអង្គរ” ហើយក្នុងពួកអធិបតីក្រុមនេះទាំងឡាយមានអោន-សៀវសារល់ក្រាវែល ១ បានជួយដោយកម្លាំងនិងគំនិតឥតគិតនឿយព្រួយជាច្រើន ដើម្បីឲ្យអ្នកដំណើរបានដឹងស្គាល់ ។

កន្ទួនខ្លះ ដែលសល់នៅមិនបានកាប់ឆ្ការចោលដែរ វេលាណាដែលគេ គេចចេញពីផ្លូវ ដែលអ្នកដំណើរទាំងឡាយបានដើរនោះ ហើយចូលទៅកាន់ផ្លូវរទេះដែលស្នាមកង់ស៊ីខ្ទង់ជ្រៅទៅ មានតែរទេះគោជាតិស្រុកអាយយ៉ាងស្រាល ៗ ទើបទៅរួច នោះគេនឹងឃើញព្រៃស្រោងត្រសុំសា-ខាមានម្លប់ត្រជាក់ល្អឥតប្រែប្រួល ប៉ុន្តែមាននៅតែទិសខាងជើងខាងពាយព្យអង្គរធំដែលមានព្រៃឈើយ៉ាងល្អ ៗ លុះជិត ៗ ទៅ ទើសនឹងប្រាសាទទៅ ព្រៃទាំងនោះកាន់តែអាក្រក់ឡើង មិនពាបសាដូចកន្ទួនឯទៀត ព្រោះមានទឹកលិចជាញឹកញយ ព្រៃនេះនឹងល្អបានលុះតែកុំឲ្យមានអ៊ីមកទើសទាល់វេលាដែលដុះឡើង ក្នុងតំបន់ទាំងនេះហើយដែលមានសត្វព្រៃជាច្រើន ដែលពួកអ្នកដំណើរ និងពួកអ្នករិះរកវិជ្ជាក្បាច់អលង្ការ បណ្តេញចេញពីទីប្រាសាទទៅ បណ្តាសត្វទាំងឡាយនោះមានសត្វពោចសម្លេងថ្ងូញថ្ងូរ សត្វរមាំងមានស្នែងទន្ទាំ និងសត្វឈ្លូស សត្វមាន់ព្រៃក៏មានច្រើននៅទីនោះ ហើយឯខ្លារខិនក៏មិនក្រប៉ុន្មាន ។

លោកសង់កុំម៉ៃមរណភាពទៅ កាលពីថ្ងៃ ២៩ អាវ្រិល ១៩១៦ ដោយចោរជាតិស្រុកអាយសម្លាប់ អ្នកដែលដំនួសលោក គឺលោក

ហង់រីម៉ារក់សាល់ ដែលជាអ្នកថែរក្សាកាន់កាប់ អង្គរសព្វថ្ងៃនេះ(១) ។

សំបុត្រចករបស់លោក ហង់រីប៉ារម៉ង់ទេ មានសេចក្ដីថាការដែលលោកសង់កុំម៉ៃ បានចាប់ផ្ដើមនោះ មិនទាន់សម្រេច ដោយលោកមរណកាលទៅ គេបានចាត់ការជាថ្មី លើប្រាសាទទាំងប៉ុន្មាននៅក្នុងព្រៃ គឺប្រាសាទបាពួនដែលគេបានកាប់ឆ្កាតាំងពីឆ្នាំ ១៩០៧ មក ប្រាសាទវិមានអាកាស ព្រះលានរបស់ស្ដេចគម្លង់ មានរូបអសុរទិន្នាគមនុស្សជាច្រើនជួរ ប្រាសាទទេពប្រណម្យមានពុទ្ធរូបថ្មយ៉ាងធំនៅនោះ ដោយអំណាចការទាំងឡាយនេះ យើងនឹងបានសេចក្ដីចម្រើនជូនបរិបូណ៌យ៉ាងឆាប់ ក្នុងប្រជុំប្រាសាទទាំងនេះ ដែលអាចនឹងបានជាគ្រាប់ពូជនៃក្រុងដែលមានកំផែងជុំវិញ ហើយដែលលោកកុំម៉ៃហៅថាកន្លែងប្រជុំនៃអង្គរធំ ប្រាសាទឯទៀតជាច្រើន ដែលនៅក្រៅកំផែងនោះ គេក៏បានរកឃើញក្នុងព្រៃទៀត គឺប្រាសាទតាកែវទិសបន្ទាយក្ដី ដែលមានស្រះ ១ ហៅថាស្រះស្រង់ ហើយក្នុងឆ្នាំមុនៗនេះគេបានរៀបរូបទេវតាទាំង ៥៤ ធំៗដែលនៅតម្រៀបនៅមុខទ្វារជ័យ តាមបណ្ដោយផ្លូវនោះឲ្យនៅលើកន្លែងសង់

១- លោកកុំម៉ៃ បានចេញផ្សាយក្នុងប៊ុល្លីតាំងសាលាបារាំងសេសនៅចុងបូព៌ាប្រទេស អំពីការទាំងឡាយដែលបានធ្វើនូវអង្គរ សៀវភៅដែលលោកបោះពុម្ពនោះ បានជាអ្នកនាំផ្លូវនៃអ្នកដំណើរទាំងឡាយ ដោយមានរៀបរាប់ជូនល្អមអំពីទ្រង់ទ្រាយទីកន្លែង រូបថត ដែលលោកថតវេលាដែលលោកនៅធ្វើការនៅទីអង្គរនោះ បានយកទៅទុកនៅសារមន្ទីរ គីមេត៍ នឹងនៅសាលាបារាំងសេសនៅចុងស្រុកបូព៌ាប្រទេស (ហាណូយ) ។

ចាស់ដូចកាលពីដើមវិញ(១) ។

ដោយមានលោកគូរែរណើរយេណេកិល ២ នាក់ជួយទំនុកបម្រុងផង គឺលោកអាល់បែរសារូត៍ និងលោក មូរីសឡុង នោះលោក ល៊ីហ្វឺ-ណូត៍ ជាចាងហ្វាងសាលា ដែលបានធ្វើការមកតាំងពី ២០ ឆ្នាំហើយ ។ ជាដំបូងបង្អស់ បានខំប្រឹងចាត់ចែងការឲ្យបានចម្រើនក្នុងរឿងរ៉ាវពង្សា-វតារនៃប្រជុំអង្គ ។

មិនសូវមានអាទិត្យណា ១ ដែលទំនេរគ្មានរបស់អ្វី ១ ដែលគេឃើញថ្មីនាំនូវអំណរមកបង្អាក់ការ ធ្វើផ្លូវដែលកំពុងខំឡើយ គឺជួនកាលឃើញចារឹក ១ ថ្មីដែលគេមិនបានស្គាល់ ជួនកាលថ្មក្បាច់អ្វី ១ ដុំ ហើយជួន-កាលឃើញមាឌរូប ១ ដែលគេបោះបង់ចោលជាច្រើនឆ្នាំនៅក្នុងព្រៃ ។

កាលពីឆ្នាំមុន គេបានគាស់ឃើញក្បាច់ចម្លាក់នៅប្របប្រាសាទនាគព័ន្ធ គឺជាប្រាសាទ ១ ដែលអ្នកដំណើរបានស្គាល់ច្បាស់ ដោយមានដើមជ្រៃដុះលប់មានឫសគ្របព័ទ្ធជុំវិញ ក្បាច់នោះមានជារូបមនុស្សស្រាត អង្គុយលុតជង្គង់ជិះលើស្មាគ្នា រូបទាំងនេះប្រហែលជាខ្ចាត់ក្ចាត់ទៅដោយការអ្វីម្យ៉ាង ៗ ដែលមិនទាន់ដឹងនូវឡើយ រូបទាំងនេះមានទឹកមុខហាក់ដូចជាមានសេចក្តីបារម្ភ និងសេចក្តីសង្ឃឹមលាយឡំជាមួយ

---

១- ការដែលលោក ហង់រីម៉ាក់សាល់ និងលោក សារល័បាតេ៊ី បានធ្វើនោះ មានអធិប្បាយក្នុងប៊ុល្លីតាំងសាលាបារាំងសេសនៅចុងបូព៌ាប្រទេសឆ្នាំ ១៩២០ ។

គ្នា គឺជារូបឆើតជាងគេដែលរចនាដោយដែកឆ្លាក់ជាងរចនាខ្មែរ ប៉ុន្តែជាឥតសំណាងណាស់ ព្រោះរូបទាំងនេះបែកបាក់ជាបំណែកអស់ទៅហើយ តើគេអាចទឹងប៉ាស់ប៉ុនឡើងវិញ ដោយយកបំណែកផ្សេងៗ ដែលកប់នៅក្នុងដីក្រោមស្លឹកឈើស្ងាប់សព្វថ្ងៃនេះនៅឡើយ មកផ្គុំបានឬទេ ប្រហែលជាយើងនឹងសង្ឃឹមបាន បើដូចនេះ ឃើញថាគេនឹងបញ្ចូលរឿងរ៉ាវ១ទំព័រថ្មីទៀត មកលើរឿងរ៉ាវដែលព្រៃទិងប្រាសាទអង្គរធ្វើឲ្យមានជាច្រើនជំពូកណាស់មកហើយនោះ ។

ក្រុងអាព្រាយ នៅថ្ងៃ ២៨ អ៊ូត ១៩២២ ។

វិកធ័រ គោលូបេហ្វ

— ចប់ —

